ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំគម្រប់ពីរ

ខែ ១០





ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៩

ពុ. ស. ២៤៧១


អ្នកទទួលខុសត្រូវ ជុំ-ទៅ

# បញ្ជីរឿង

ទំព័រ

# ប្រវត្តិព្រះពុទ្ធរូបពុម្ព

សាស្ត្រាចារ្យ សេដេស រៀបរៀងជាភាសាសៀម

ព្រះស្នេហាសាទេព ក្រសេម

បណ្ឌិតនៅព្រះរាជបណ្ណាល័យ កម្ពុជា

ប្រែមកជាភាសាខ្មែរ

(១)

ព្រះពុទ្ធរូបពុម្ព ជារបស់បុរាណជាន់ចាស់អង្វែងមកហើយមានមនុស្ស គិតផ្ដើមធ្វើឡើង តាំងតែសម័យជាន់ដើម នៃព្រះពុទ្ធសាសនកាល គឺ ក្រោយព្រះពុទ្ធអង្គបរិនិព្វានទៅ មិនយូរប៉ុន្មានដោយយោបល់អ្នករៀបរៀងគាន់ថា ជារបស់គួរគោរពរាប់អានហើយជាប្រយោជន៍ស្រួលច្រើន ក្នុងការជ្រាវរកពង្សាវតារ ដែលកន្លងទៅហើយនាំយកមកប្រៀបធៀប ហើយធ្វើសេចក្ដីសន្និដ្ឋាន ។

ប្រវេណីការសាងព្រះពុទ្ធរូបពុម្ព ដោយវិធីសង្កត់ផ្ដិតដោយមេពុម្ព ឬបោះដោយត្រាអម្បាលនេះ ប្រាកដមានតែក្នុងព្រះពុទ្ធសាសនាប៉ុណ្ណោះ ចំណែកឯក្នុងព្រាហ្មណ៍សាសនា ជាមានរឿងក៏មែនដូចម្ដេចមិនប្រាកដ បណ្ដាព្រះពុម្ពផ្សេង ៗដែលគេបានប្រទះឃើញក្នុងប្រទេសមណ្ឌលពាយព្យ គឺក្នុងប្រទេសឥណ្ឌា និងមណ្ឌលហ្វូណន ប្រទេសចិន ក្នុងគូហាផ្សេង ៗ

ក្នុងជ្រោយម៉ាឡេយូរនៅឆ្នេរទន្លេសមុទ្រ យួនអម្បាលនេះ សុទ្ធតែជារបស់ខាងប៉ែកព្រះពុទ្ធសាសនាទាំងអស់ ។

តាមសេចក្ដីគិតឃើញដំណែបខាយរបស់សាស្ត្រាចារ្យហ្វូសេ យើងអាចនឹងចាប់មូលហេតុបានថា ព្រះពុទ្ធផ្សេង ៗ អម្បាលនេះ មានមូលហេតុមកអំពីសំវេជនីយស្ថានដ៏ធំ ៗ របស់ព្រះពុទ្ធអង្គទាំង ៤ ដំបន់ គឺនៅសួនលុម្ពិនីវន ក្នុងដែននគរកបិលពស្តុជាទីដែលព្រះសាក្យមុនីប្រសូតិ ១ ដំបន់ ពុទ្ធគយាទីដែលព្រះអង្គត្រាស់ដឹងនូវអនុត្តរសម្មាសម្ពោធិញាណ ១ ដំបន់ ព្រៃឥសិបតនមិគទាយវន ក្នុងដែននគរពារាណសីជាទីដែលព្រះអង្គសម្ដែងព្រះធម្មចក្រ បឋមទេសនា ១ ដំបន់សាលវនោទ្យានក្នុងដែននគរកុសិនារា ជាទីដែលព្រះអង្គបរិនិព្វាន ១ ដំបន់នេះឯងជាមូលហេតុដើម ។

សាស្ត្រាចារ្យ ហ្វូសេ ពោលថា មិនសូវជាក្រអ៊ីដែលនឹងគិតរឿងនេះព្រោះថា ធម្មតាពួកអ្នកសប្បុរស ដែលទៅកាន់ទីសំវេជនីយស្ថានទាំង ៤ តំបន់នោះ គេតែងនាំយករបស់អ្វីមកជាគ្រឿងរឭក របស់អ្វីជាដំបូងដែលគេគោរពរាប់អាន ហើយនាំគ្នាសាងឡើង គឺព្រះពុទ្ធ គេធ្វើតពុម្ពនឹងផែនសំពត់ ឬ ធ្វើដោយពុម្ពឈើដោយដី ដោយក្អក ដោយលោហធាតុឯណានីមួយ នៅនគរកបិលពស្តុស្រុកពុទ្ធគយា នគរពារាណសី និងនគរកុសិ-នារា មានព្រោកដដាក់ស្ពានហើយថា ក្នុងស្រុកទាំង ៤ នេះ នគរកុសិ-

នាព គេបានឃើញទីដែលព្រះសាស្ដា ស្ដេចបរិនិព្វានមុនរបស់ដទៃដោយធ្វើគ្រឿងសម្គាល់ទុក គឺសាងព្រះស្តូបនៅត្រង់ទីដែលព្រះអង្គបរិនិព្វានទុកតាំងអំពីដើមមក នៅនគរពោពណាសី គេសាងរូបសីមាធម្មចក្រទុកជាគ្រឿងសម្គាល់ដល់ចក្រ គឺព្រះធម៌ដ៏អស្ចារ្យរូបសីមាធម្មចក្រនេះមានរូបម្រឹគ ១ គូ នៅជាប់នឹងផែននោះជាធម្មតា នៅស្រុកពុទ្ធគយា មានដើមពោធិព្រឹក្ស ដែលព្រះអង្គចូលទៅអាស្រ័យប្រថាប់ក្រោមម្លប់ កាលត្រាត្រាស់ដឹងអនុត្តរសម្មាសម្ពោធិញាណនោះ ទីតាំង ៣ ដំបន់នេះមានរបស់ជាគ្រឿងសម្គាល់ដូចពោលមកនេះប្រាកដនៅឥតមានសង្ស័យឡើយ នៅនគរកបិលពស្តុនោះមានរបស់អ្វីជាគ្រឿងសម្គាល់ឲ្យប្រាកដនោះនឹកពុំទាន់ឃើញច្បាស់នូវមានសង្ស័យ (១) ។

តាមយោបល់យល់ឃើញរបស់សាស្ត្រាចារ្យ ហ៊្វូសេ នេះ ធ្វើឲ្យយើងទទួលដឹងថា ព្រះពុទ្ធជាអនុស្សាវរីយ៍ របស់សំវេគនីយស្ថាននោះ ៗ ហើយជាគ្រឿងអធិប្បាយលក្ខណៈព្រះពុទ្ធសឹងមានច្រើនយ៉ាងផងគ្នា ដ្បិតព្រះពុទ្ធអម្បាលនេះមានចំនួនច្រើន សម្គាល់ដឹងដោយកិរិយាដែលធ្វើឡើង គឺមិនតែរូបព្រះពុទ្ធអង្គទ្រង់ទៅប៉ុណ្ណោះនៅមានរូបព្រះពុទ្ធអង្គចំពោះគ្រាចំពោះ

(១) សាស្ត្រាចារ្យ សេដេស សន្និដ្ឋានថា ប្រហែលជាមានស្នាមយុគលបាទ គឺសម្គាល់សេចក្តីថា កាលព្រះពោធិសត្វប្រសូត ស្តេចព្រះរាជដំណើរទៅកាន់ទិសទាំង ៤ ក្នុងមួយទិស ៧ ជំហាន. គេគង់សាងស្នាមព្រះបាទទុកទេដឹង ។

យ៉ាងក្នុងវត្តនីមួយ ឬ ក្នុងទីនីមួយផងដូចយ៉ាងព្រះពុទ្ធខ្លះគេសាងនៅក្រោម កំពូលប្រាសាទ ព្រះពុទ្ធដែលពោលមកនេះ បានប្រទះឃើញនៅដំបន់ កំពង់ក្តារជិតស្រុកដៃយា មានលក្ខណៈដូចព្រះពុទ្ធដែលប្រទះឃើញនៅជិត ស្រុកពុទ្ធគយា ក្នុងប្រទេសឥណ្ឌា កំពូលប្រាសាទ ដែលមានព្រះពុទ្ធ រូបប្រថាប់អង្គុយនៅខាងក្រោម ធ្វើកិរិយាកំពុងសម្តែងធម៌ទេសនានេះ ជា កំពូលប្រាសាទ ដែលបានថែបមកអំពីស្រុកពុទ្ធគយា ជាប្រាកដពិតចាំង ព្រះពុទ្ធ ដែលបានប្រទះនៅស្រុកដៃយានេះ ក៏ជាថ្មីដែជាងឥណ្ឌាដូចគ្នា នឹងកំពូលប្រាសាទនៅស្រុកពុទ្ធគយា ដោយមិនគោងសង្ស័យឡើយ ( មើលរូបទី ១ ) ។

ព្រះពុទ្ធមានមកតាំងអំពីដើមហើយ ជារបស់គេកប់អានយ៉ាង អនុស្សាវរីយ៍ ដោយហេតុដែលមានសេចក្តីនិយមកប់អានរូបសិតច្រើនឡើង ៗ ការសាងព្រះពុទ្ធរូប ឬ រូបគោរពយ៉ាងដទៃ ៗ ក្នុងសាសនាកាន់ថាជាមូល នៃកុសល តែការសិតរូបដោយលោហៈនិងឆ្លាក់ដោយឈើ ដោយថ្មមិន បានធ្វើទៅកល់គ្នា សាងបានតែបុគ្គលជាន់ខ្ពស់ មានក្សត្រិយជាដើម មនុស្សទាល់ក្រតែជាអ្នកត្រូវការបុណ្យកុសល ដើម្បីនឹងលើកខ្លួនឲ្យខ្ពស់ រុងរឿងទៅក្នុងជាតិមុខ ទើបនាំគ្នាសាងរូបដោយដី ដែលជារបស់ធ្វើ បានដោយងាយ ដោយមិនគោងអាស្រ័យសតិបញ្ញាដ៏សុខុមឬទ្រព្យសម្បត្តិ

កាលគេមានប្រាថ្នាដូចនេះហើយទាំងមានទុកាសធ្វើបានផង ទើបកើតមានសាងរូបដោយដីឡើងជាច្រើន ដូនកាលក្នុងទីមួយៗក្នុង ៗ មានដល់ទៅ ៨៤.០០០ រូបក៏មាន ខនេះឯងជាមូលហេតុនៃការសាងព្រះពុទ្ធរូបដោយដី សឹងបានប្រទះឃើញរបស់ដែលសាងទុកជាច្រើននៅក្នុងគូហាផ្សេង ៗ ក្នុងជ្រោយមល្លាយូ មើលទៅថ្វីដៃដែលធ្វើដូចជាថ្វីដៃរបស់ពួកឬសី គឺពួកអ្នកដែលញ៉ាំងជីវិតរបស់ខ្លួនឲ្យកន្លងទៅដោយការស្វែងបុណ្យកុសល ។

អាស្រ័យសេចក្តីត្រិះរិះឲ្យជ្រៅជ្រះបន្តិចទៅ ក៏មិនសូវជាក្រលំបាកណាស់ដែរ ក្នុងការដែលទឹងទឹកមើលទៅដល់រូបភាពជិតខាងវត្តព្រះពុទ្ធសាសនាបុរាណ, ដែលមានពិធីធ្វើបុណ្យឲ្យទានក្នុងវេលាទេសកាល អ្នកស្រុកជិតខាងគន់ធ្វើរបស់យកទៅចំណាយឲ្យអ្នកទាំងពួង គឺខ្លះគាក់តែងគ្រឿងក្រអូបផ្កា ទៀន ធូប យកទៅចំណាយ ខ្លះបោះពុម្ពព្រះពុទ្ធរូបយកទៅចំណាយឲ្យពួកសប្បុរសដែលមកពីចម្ងាយ ដោយគិតតម្លៃថោក ៗ ប្រយោជន៍នៃការប្រើមេពុម្ពធ្វើព្រះពុទ្ធរូប គឺដើម្បីជាវឲ្យពួកសប្បុរស ៗ ជាវយកទៅទុកជាទីពឹង ឬ យកទៅប្រតិស្ឋានទុកនៅវត្តផ្សេង ៗ ដើម្បីឲ្យមហាជននមស្សការតទៅ ដោយប្រការដូចនេះ ។

ឯមេពុម្ពនោះមានរូបសណ្ឋានដូចម្តេច មេពុម្ពនោះគេធ្វើដោយទន់ដែង បោះឲ្យជ្រៅធ្វើសណ្ឋានជារូបតាមត្រូវការ ហើយធ្វើមានដង

សម្រាប់កាន់ ការធ្វើមេពុម្ពដូចនេះ ចម្រើនច្រើនឡើងដោយលំដាប់ ដោយមនុស្សអ្នកត្រូវការសាង កាន់តែមានចំនួនច្រើនឡើង ទាល់តែជាហេតុឲ្យពួកជាងសាងពុម្ពត ៗ គ្នា ទៅជាគំនរគរសែន ។

ព្រះពុម្ពបុរាណ ច្រើនមានចារឹកអក្សរតួតូច ៗ ខាងលើខ្លះ ខាងខាងខ្លះ ខាងក្រោយខ្លះ ជាភាសាសំស្ក្រឹតក៏មាន ជាភាសាមគធៈក៏មានជាតួអក្សរទេវនាគរី ដែលប្រើសព្វសាយទូទៅក្នុងប្រទេសឥណ្ឌា ប៉ែកខាងលើក៏មាន ជាតួអក្សរឥណ្ឌាប៉ែកខាងក្រោមក៏មាន ជាតួអក្សររបស់ពួកប្រទេសដ៏នៅក្នុងរវាងឥណ្ឌា និងចិនក៏មានស្រេចហើយតែទៅទីដែលប្រទះនឹងអាយុរបស់ព្រះពុម្ពនោះ ពាក្យចារឹកអម្បាលនោះច្រើនតែដូចគ្នា គឺជាគាថាដូចនេះ ។

យេធម្មាហេតុប្បភវា តេសំហេតុំតថាគតោ អាហ
តេសំចយោ និរោធោ ឯវំវាទី មហាសមណោតិ ។ ប្រែ

បានសេចក្ដីដូចតទៅនេះ ធម៌ទាំងឡាយឯណាកើតអំពីហេតុ ព្រះតថាគតទ្រង់សម្ដែងហេតុនៃធម៌ទាំងឡាយនោះ និងសេចក្ដីរលត់នៃធម៌ទាំងឡាយនោះ ព្រះមហាសមណៈមានវាទៈយ៉ាងនេះ ។

សេចក្ដីសង្ខេបនៃព្រះគាថា ៤ បាទនេះ ជាពាក្យប្រដៅរបស់ព្រះបរមសាស្ដាមួយចំណែកដែរ សឹងអាចឲ្យភ្លឺដល់សេចក្ដីពិត ល្មមជាគ្រឿងសម្រាប់ប្រៀបធៀប ហើយជ្រើសរើសសេចក្ដី អធិប្បាយនៃពាក្យប្រដៅ

ចំណែកដទៃ ៗ បាន មិនតែប៉ុណ្ណោះតាមក្នុងរឿងចាស់ ៗ ជាច្រើនរឿង ពោលទុកថា ដោយសេចក្តីសង្ខេបនៃព្រះគាថានេះ ជាហេតុឲ្យព្រះពុទ្ធអង្គបានអគ្គសាវកទាំង ២ គឺព្រះសារីបុត្តនិងព្រះមោគ្គល្លាន ដែលវេលាក្រោយពួកសង្ឃមណ្ឌលរាប់អានជាទី ២ រងចុះមកអំពីព្រះសាស្តា ន័យ ១ ទៀតដែលធ្វើឲ្យព្រះអគ្គសាវកទាំង ២ ចូលចិត្តសេចក្តីបានដោយរហ័ស ត្រង់នេះបានប្រាកដដល់ពួកពុទ្ធសាសនិកជនថា ជាធម៌វិសេសមួយយ៉ាង មើលទៅគេរាប់អានថាជាសមទ្ធមន្តដ៏វិសេស សម្រាប់នឹងប្រែខ្វះសេចក្តីរាប់អានរបស់បុគ្គលដែលមិនធ្លាប់ស្តាប់ន័យនេះ ឲ្យត្រឡប់ទៅជាអ្នករាប់អានផង តាមហេតុទាំងឡាយដូចបានពោលមកនេះ ទើបគេធម៌បទឯណាទីមួយឲ្យវិសេសទៅជាងគ្មានក្នុងការដែលនឹងយកមកចារឹកនៅព្រះពុទ្ធ · ជាវត្ថុតូចស្រាលស្រួលនឹងអញ្ជើញទៅប្រតិស្ឋាននៅទីនោះ ៗ ជាគ្រឿងជួយប្រកាសព្រះពុទ្ធវចនៈឲ្យរុងរឿងផ្សាយសុសសាយចេញទៅ ៗ

ក្នុងសម័យនេះ ក្នុងប្រទេសសៀមកាលសង្កេតឲ្យជាក់ទៅហើយ អាចនឹងឃើញព្រះពុទ្ធរូបតូចជាន់ចាស់ ៗ ច្រើនតែជារូបគ្រាមហាបាដិហារ ដែលព្រះអង្គទ្រង់ធ្វើនៅនគរសាវត្ថី កាលព្រះពុទ្ធអង្គទ្រង់ផ្ចាញ់តិរ្ថិយនិគ្រន្ថ ហើយទ្រង់ទូន្មានបុគ្គលឲ្យជ្រះថ្លា ត្រឡប់កាន់ព្រះពុទ្ធសាសនាមានចំនួនជាច្រើន ការធ្វើឲ្យប្រែផ្លាស់អំពីសេចក្តីរាប់អានដើមនេះ ជាការអឹកធឹកកញ្ជ្រោលពេលរែកខ្លាំង ស្មើនឹងការបង្គាប់ឲ្យផ្លាស់សាសនា កាលបើ

ដូចនេះហើយ យើងអាចគិតឃើញបានថា បុគ្គលអ្នកសាងព្រះពុទ្ធរូបជាច្រើនពាន់អង្គ ហើយបញ្ចុះទុកក្នុងគូហា និងក្នុងព្រះស្តូបផ្សេង ៗ ដោយដើម្បីជាគ្រឿងជួយប្រកាសព្រះពុទ្ធសាសនា ទៅក្នុងអនាគតកាលដ៏វែងឆ្ងាយ ឲ្យផ្សាយសព្វសាយទៅទៀតបានជាច្រើនពាន់ឆ្នាំ មើលទៅពួកពុទ្ធមាមកបុគ្គល ប្រហែលជាយល់ទៅខាងមុខថា កាលគ្រប់អាយុព្រះពុទ្ធសាសនា ៗ វៀរពេយចុះការដែលមកប្រទះឃើញព្រះពុទ្ធរូបនិងព្រះគាថាសង្ខេប ដ៏ជាពាក្យប្រដៅរបស់ព្រះអង្គនៅមានស្ថិតនៅ អាចជាគ្រឿងតឿនចិត្តឲ្យត្រឡប់កើតសេចក្ដីជ្រះថ្លាជឿកាន់ឡើងវិញ ព្រះពុទ្ធសាសនាក៏នឹងស្ថិតនៅតទៅទៀត ៗ

បើនឹងសារុបសេចក្ដីទៅហើយ គង់បានសេចក្ដីថា ព្រះពុម្ពដែលក្នុងជាន់ដើមគេធ្វើជំនួសរបស់ ឬរូបជាគ្រឿងរឭករបស់សំវេជនីយស្ថាននោះ ជំណាមកក្លាយទៅជារបស់សំខាន់មួយយ៉ាងឡើង គឺជាគ្រឿងធ្វើឲ្យមនុស្សត្រឡប់ចិត្តរាប់អាន ព្រះពុទ្ធសាសនាឡើង ហាក់បីដូចជាយកមន្តដ៏ស័ក្តិសិទ្ធិមកដាស់ដូចនោះ ទាំងជាបុណ្យកុសល ដល់អ្នកទាល់ក្រដែលបានសាងឡើងនោះផង សូម្បីសព្វថ្ងៃនេះ ក៏នៅមានមនុស្សយកទៅប្រើជារបស់គង់ត្រព័ន្ធកាប់មិនមុតបាញ់មិនចេញក៏មានច្រើន ៗ



# អំពីដំណើរទៅកាន់ស្រុកកូសាំងស៊ីន

## ចំពោះខែត្រដែលមានវត្តលោកសង្ឃខ្មែរ

ព្រះគ្រូសង្ឃវិជ្ជា បា តាត អាចារ្យបង្រៀន

ភាសាសំស្ក្រឹតនៅសាលាបាលីជាន់ខ្ពស់ក្នុងក្រុងភ្នំពេញ អធិប្បាយ

(បប់)

## ដំណើរក្នុងខែត្របាទៀង ថ្ងៃ ១១ ខែហ្វេវរីយេ ឆ្នាំ ១៩២៨

ម៉ោង ៩ កន្លះព្រឹក លោកគ្រូពេទ្យបារាំងម្នាក់ បានជូនបាង ហ្វាងព្រះរាជបណ្ណាល័យ ១ អន្ទើនូវអស់យើង ចូលទៅមើលវត្តលោកសង្ឃ យួន ដែលនៅក្នុងបុស្តិ៍បាទៀងនោះ លោកគ្រូពេទ្យនោះបាននិយាយពន្យល់ពីសេចក្តីប្រតិបត្តិផ្សេង ៗ របស់សង្ឃ យួនវត្តនោះ មានប្រតិបត្តិមិនបរិភោគសាច់ត្រីជាដើម ថាជាសេចក្តីប្រតិបត្តិត្រឹមត្រូវល្អណាស់ លោកគ្រូពេទ្យនោះ ចូលចិត្តនឹងលទ្ធិលោកសង្ឃយួនដោយក្រៃពេក ព្រោះលោកប្រកាន់ជឿក្នុងលទ្ធិពុទ្ធសាសនាខាងមហាយានដោយច្រើន ៗ

ដល់ម៉ោង ១០ កន្លះព្រឹក ចេញពីវត្តលោកសង្ឃយួនហើយហួសទៅមើលវត្តលោកសង្ឃខ្មែរ ១ នៅលើកំពូលភ្នំ ឈ្មោះវត្តគិរីវង្ស ៗ នេះចម្ងាយពីបាទៀងចំនួន ៩ គីឡូម៉ែត្រ កាលទៅដល់ក៏មិនឃើញមានរបស់អ្វីជំនុត្តមក្នុងវត្តនោះឡើយ សូម្បីតែទីវិហារក៏មិនទាន់បានសង់ផង មាន

តែកុដិនិងសាលាតូច ១ ព្រោះវត្តនេះគេទើបនឹងកសាងចំនួន ៣-៤ ឆ្នាំ ប៉ុណ្ណោះ ចាងហ្វាងព្រះរាជបណ្ណាល័យបានឲ្យសួរជួបវត្តឯទៀត ហើយក៏ត្រឡប់មកឯហោទៀនវិញ ។

វេលារសៀល ម៉ោង ៣ ខ្វះ ១៥ មីនុត ចេញដំណើរទៅម្ដងទៀត ចំពោះទៅមើល វត្តដែលមាននៅក្នុងស្រុកហុងចុម ក្នុងដំណើរនេះ មានសេក្រេទែរយួនម្នាក់ដែលលោកឡាដមីនីស្ត្រាទ័រ ចាត់ឲ្យជាអ្នកជូនទៅជាមួយផង ព្រមទាំងចៅហ្វាយស្រុកយួនម្នាក់ដែលជាឥស្សរក្នុងស្រុកហុង ចុម នេះក៏ជូនទៅដែរ តែទៅដោយរថយន្ត ១ ផ្សេង ។ កាលទៅដល់ផ្លូវ ១ ដែលបែកចូលទៅវត្ត ចៅហ្វាយស្រុកយួនក៏ឈប់ចាំនៅនោះ ចំណែកអស់យើងបានហួសទៅមើល ព្រះពុទ្ធរូប ៣ អង្គ ដែលនៅក្នុងភ្នំកាបជីឡាតាប៉ូក្បែរមាត់សមុទ្រ កាលដែលទៅភ្នំនោះ បានចូលទៅក្នុងរូងភ្នំ ១ នោះមានទំហំទទឹងចំនួនប្រហែល ៦ ម៉ែត្រ បណ្ដោយប្រមាណប្រហែលជា ៣០ ម៉ែត្រ ហើយក្នុងរូងនោះងងឹតព្រោះគ្មានពន្លឺពីលើ ពីខាងមានតែផ្លូវចូលនិងចេញតែទោះបីដូចនោះក្នុងរូងនោះក៏គង់តែត្រជាក់ល្ហើយស្រួល ដោយមានខ្យល់មកពីវាលសមុទ្រ ចូលទៅតាមផ្លូវដែលចេញពីរូងភ្នំ ១ នោះជាទីកើតឯង ឥតមានអ្នកណាទៅដាប់ប្លុងភ្នំនោះទេ នៅក្នុងរូងនោះមានព្រះពុទ្ធរូបបែបខាងហីនយាន ២ អង្គ និងព្រះពុទ្ធរូបបែបខាងមហាយាន ដែលលោកសង្ឃយួនទើបនឹងសាងខាង

ក្រោយ ១ អង្គទៀត ជា ៣ អង្គនៅប្រែបទ្វារដែលចេញពីរូង មានព្រះពុទ្ធរូបបែបខាងហីនយាន ១ អង្គទៀតតែបែបក្លាយបន្តិច ៗ យើងបានដឹងអំពីចៅហ្វាយស្រុកយួននិយាយប្រាប់ថា ទីរូងភ្នំនេះ កាលពីដើមក្នុងកាលសៀមមានអំណាចចូលមកត្រួតត្រាក្នុងទឹកដីខ្មែរ បានតាក់តែងទីរូងភ្នំនេះជាអាពមលោកសង្ឃខ្មែរ ហើយបានកសាងព្រះពុទ្ធរូបទាំង ៣ អង្គ គឺ ២ អង្គខាងក្នុង ១ អង្គខាងក្រៅ ដល់ស្រុកនេះត្រឡប់បានមករបស់យួន ក៏នៅតែមានលោកសង្ឃខ្មែរដែរ តែដល់យូរ ៗ មក លោកសង្ឃខ្មែរមិនហ៊ាននៅក៏ចេញពីទីនេះអស់ទៅ ទើបលោកសង្ឃយួនមកនៅថែរក្សាទីនេះជាខាងក្រោយ ហើយបានសាងព្រះពុទ្ធរូប បែបខាងមហាយាន ១ អង្គ នៅខាងក្នុង ដរាបដល់សព្វថ្ងៃនេះ ក៏ត្រឡប់ទៅជាទីវត្តលោកសង្ឃយួនគេហៅថាវត្ត ហុងចុម ។

ដល់វេលាម៉ោង ៥ ល្ងាច ត្រឡប់ពីទីនោះមកវិញដល់ម៉ោង ៥ និង៤០ មីនុតបានដល់មកវត្តលោកសង្ឃខ្មែរដែលជាវត្តបំរុងទីងចូល ហៅថាវត្តទន្លាប់ក្នុងខណ្ឌបិញអាង កាលមកដល់បានឃើញលោកសង្ឃ និងឧបាសកជាច្រើន ចេញមកទទួល ហើយចូលទៅក្នុងវត្តឡើងទៅលើសាលាជាទីរៀបចំចាំទទួល ទើបតាំងហ្វាងព្រះកដបណ្ណាល័យ បានសួរដួចវត្តឯទៀត ៗ ហើយបាននិយាយពន្យល់ពីកិច្ចរៀនសូត្រ និងអំពីពដការស្រុកកូសាំងស៊ីន មានប្រាថ្នាបង្កើតឲ្យមានសាលារៀនខាងខ្មែរតាមវត្ត

លោកសង្ឃខ្មែរ លោកអធិការវត្តព្រមទាំងអ្នកមុខអ្នកការជាតិខ្មែរខ្លះ និយាយថាស្រុកយើងនេះពួកខ្មែរ ៗ ល្ងង់ពេកណាស់បើបានរាជការជួយទំនុកបំរុង ឲ្យមានសាលាសម្រាប់រៀនសូត្រដូចនេះ យើងមានអំណរក្រៃពេកណាស់ ៗ

ចំណែកចៅហ្វាយស្រុកយួននោះក៏យកចិត្តទុកដាក់ណាស់ដែរខំជួយនិយាយពន្យល់ឲ្យជាតិខ្មែរ ទាំងលោកសង្ឃនិងបាសកខំប្រឹងរៀនសូត្រឡើង ហើយបាននិយាយនឹងចាងហ្វាងព្រះរាជបណ្ណាល័យថាពួកខ្មែរត្រង់នេះល្ងង់ច្រើនណាស់ហើយគ្មានសាលារៀន នឹងចាត់ឲ្យទៅរៀនសាលាឯណា ៗ ក៏ទៅមិនកើតព្រោះសាលាទាំងនោះសុទ្ធតែនៅឆ្ងាយ ៗ ហេតុនេះគួរតែនឹងបង្កើតឲ្យមានសាលាបង្រៀន ១ ក្នុងវត្តនេះ ចាងហ្វាងព្រះរាជបណ្ណាល័យក៏យល់ព្រមតាម សេចក្ដីយល់របស់ចៅហ្វាយស្រុកយួននោះ ហើយបានប្រគេនសៀវភៅនិងរូបផ្ដិតពុម្ពដល់លោកចៅអធិការវត្តនោះរួចត្រឡប់មកតាមផ្លូវដែលត្រង់មកលើហាទៀង តែបំរុងនឹងចូលវត្ត ២ ទៀតដែលនៅតាមផ្លូវនេះ ៗ

ដល់ម៉ោង ៧ យប់ បានចូលទៅវត្តសំប៉ានលើកក្នុងខណ្ឌថាញ់យី ហើយបានសួរបានប្រគេនសៀវភៅនិងរូបផ្ដិតពុម្ព ដល់លោកអធិការរួចចេញមកវិញ ចូលទៅវត្ត ១ ទៀតហៅវត្តបឹងដុំ កាលចូលទៅដល់ឃើញលោកសង្ឃ និងបាសកជាច្រើននៅចាំត្រៀបត្រា ហើយឡើង

ទៅលើសាលា បានសួរបានប្រគេនសៀវភៅ ដល់លោកអធិការវត្ត ដូចវត្តឯទៀត ៗ ចៅហ្វាយស្រុកយួននោះបានជំរាបចាងហ្វាងព្រះរាជបណ្ណាល័យថា វត្តនេះ ជាវត្តធំមាំមួនជាងវត្តឯទៀត ៗ ក្នុងស្រុកនេះ មានប្រជុំភូមិខ្មែរជាច្រើននៅជុំវិញទីវត្តនេះ ហេតុដូចនេះគួរតែបង្កើតឲ្យមានសាលាបង្រៀន១ ក្នុងវត្តនេះ ចាងហ្វាងព្រះរាជបណ្ណាល័យ ក៏យល់ព្រមតាមសេចក្ដីយល់ឃើញរបស់ចៅហ្វាយស្រុកនោះ ហើយចេញពីទីនោះត្រឡប់មកវិញ ដល់ម៉ោង ៨ កន្លះយប់ បានដល់មកដល់ឯឃ្លាំងហាទៀង ៗ

ថ្ងៃ ១២ ខែ ហ្វេវ្រីយេរ ឆ្នាំ ១៩២៨

វេលារសៀលម៉ោង ៤ និង ១៥ មីនុតចេញទៅវត្តកោះចន្ទុះតាមផ្លូវគ្រង់កំពង់ត្រាច កាលទៅដល់វត្តនោះបានឃើញលោកសង្ឃក្នុងវត្តស្លៀកពាក់ស្បង់ចីពររៀបរយគ្រាន់បើ ៗ ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរ និងប្រគេនសៀវភៅដូចវត្តឯទៀត រួចចេញពីនោះត្រឡប់មកវិញនូវតែ ៣ គីឡូម៉ែត្រទៀតនឹងដល់ទៅហាទៀង មានភ្នំ ១ នៅក្បែរផ្លូវឈ្មោះភ្នំកូនត្រុំ នៅភ្នំនេះមានរូងជាគូហា ដូចភ្នំកាប់ជីឡាតាប៉ូ នូវក្បែរមាត់សមុទ្រនោះដែរ តែរូងភ្នំកូនត្រុំនេះមានទំហំធំ និងវែងជាងរូងភ្នំកាប់ជីឡាតាប៉ូ សព្វថ្ងៃ ទីរូងនេះជាវត្តលោកសង្ឃយួន គេរៀបចំស្អាតបាតស្រួលបួលណាស់ ចៅហ្វាយស្រុកយួនបាននាំឡើងទៅមើលក្នុងរូងភ្នំកូនត្រុំនេះ រួចហើយក៏ត្រឡប់មកឯហាទៀងវិញ ៗ

ដល់ម៉ោង ៧ យប់ លោកគ្រូពេទ្យបារាំង បាននាំម៉ាដាមលោក ឡាដមីនីស្ត្រាទ័រ នៅហាទៀង និងចាងហ្វាងព្រះរាជបណ្ណាល័យ មួយអន្លើ នូវអស់យើង ឲ្យទៅមើលទៅស្តាប់លោកសង្ឃ យួន សូត្រធម៌ វេលាដែលទៅដល់លោកគ្រូពេទ្យនោះបានយកក្បួនសៀវភៅធម៌ ដែលលោកសង្ឃយួន តែងសូត្រជាអក្សរយួនមកពន្យល់ប្រាប់ឲ្យស្គាល់ឈ្មោះ មានឈ្មោះថាប្រាជ្ញាបារមីតាជាដើម ជាពាក្យសំស្ក្រឹតតែក្លាយ ហើយប្រាប់ថាសុទ្ធតែជាធម៌ក្រ ៗ ៗ ទើបខ្ញុំបានសួរទៅលោកគ្រូពេទ្យនោះថា លោកសង្ឃយួនដែលសូត្រធម៌ដឹងសេចក្តីទេ លោកគ្រូពេទ្យប្រាប់ថាដឹងសេចក្តីអាចប្រែមកជាភាសាយួនបាន ខ្លួនខ្ញុំដែលបានឮដូចនេះ ក៏នឹកថាប្លែក ព្រោះធ្លាប់ឮយួនឧបាសក ៗ ច្រើនគ្នា គេនិយាយថាលោកសង្ឃយួនសូត្រធម៌មិនដឹងសេចក្តីអ្វី ទើបតែលោកគ្រូពេទ្យបារាំង ១ នេះ លោកប្រាប់ប្លែកពីគេពល់គ្នា បើថាដូចនេះមែនទោះបីដូចម្តេចក៏ឃើញថាគ្រាន់បើសមគួរ ដល់ជាតិអ្នកកាន់ព្រះពុទ្ធសាសនា ៗ លុះដល់ពេលដែលលោកសង្ឃយួនសូត្រធម៌ គឺលោកអធិការឯងជាអ្នកសូត្រ លោកនោះស្លៀកខោសរពាក់អាវលឿង តែវេលាដែលសូត្រធម៌ ឃើញយកអាវពណ៌លឿងទុំ ហៅថាអាវកាសាមកពាក់ពីខាងក្រៅរួចទើបសូត្រធម៌ ៗ ខ្លួនខ្ញុំនេះតែធ្លាប់មកយូរហើយ ពីគ្រឿងស្លៀកពាក់របស់លោកសង្ឃ យួន ក្នុងពេលនោះបានឃើញលោកគ្រូពេទ្យបារាំង លោកអាចនិយាយពន្យល់

ពីធម៌អាថ៌របស់លោកសង្ឃយួន ក៏នឹកថាប្រហែលជាលោក នឹងអាចពន្យល់ពីរឿងស្លៀកពាក់បានទៀត ទើបខ្ញុំបានសួរថា សូមលោកពន្យល់អាត្មាឲ្យបានយល់ផងពីកិច្ចស្លៀកពាក់របស់លោកយួន ព្រោះអាត្មាមិនយល់សោះ ហេតុដូចម្តេចបានជាលោកសង្ឃយួនស្លៀកពាក់ខោអាវជួនកាលពណ៌ស ជួនកាលពណ៌ខ្មៅ លុះដល់ពេលសូត្រធម៌ទើបយកសំពត់កាសាពណ៌លឿងទុំមកពាក់ ។ លោកគ្រូពេទ្យបាកំងនោះ លុះឮខ្ញុំសួរដូចនោះ លោកមិនឆ្លើយប្រាប់ដូចម្តេចសោះ ស្រាប់តែនិយាយបែបដូចខឹងអន់ចិត្ត ថាលោកសង្ឃខ្មែរចេះតែមើលងាយលោកសង្ឃយួន បើឃើញលោកសង្ឃយួនចូលវត្តគ្មានក្រឡេកមើលទេ ឯលោកសង្ឃយួនវិញបើឃើញលោកខ្មែរចូលវត្តក៏ទទួលរាប់អានដោយគួរសម ។ លោកគ្រូពេទ្យនេះទំនងជាមិនដឹង ពីរបៀបស្លៀកពាក់លោកយួននេះទេដឹងបានជារករឿងនិយាយផ្សេងទៅវិញ ខ្លួនខ្ញុំកំពុងតែនិយាយរឿងនេះមិនទាន់ហើយ ក៏ដល់ពេលចេញពីវិហារលោកសង្ឃយួន ទើបចេញមកតាំងអស់គ្នា ។

ថ្ងៃ ១៣ ខែហ្វេវ្រីយេរ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ព្រឹក ចេញពីបាទៀងឆ្ពោះទៅ យ៉ាង ថាញ់ (ខ្មែរហៅព្រៃទ្រមែង) ដោយកប៉ាល់សាលុបរបស់អ្នកជំនួញតាមផ្លូវព្រែកដីក ដល់ម៉ោង ១០ ព្រឹកដល់ទៅកំពង់តាផូរ ។ មានចៅហ្វាយស្រុកយួនម្នាក់ នៅស្រុក យ៉ាង ថាញ់ បានរៀបចំទូកមកនៅចាំទទួលនៅទីកំពង់តាផូរ

នោះ ដើម្បីនឹងទទួលជូនដំណើរទៅកាន់វត្តលោកសង្ឃខ្មែរ ដែលនៅក្នុងដំបន់ឥតមានផ្លូវ នឹងទៅដោយរថយន្តឬសាលុបបាន ដោយលោកឡាដមីនីស្ត្រាទ័រនៅហាទៀងបានបង្គាប់ទៅពីថ្ងៃមុន កាលដែលដល់ទៅកំពង់តាផ្លូវក៏ចុះពីកប៉ាល់ដំនួញ ឡើងទៅលើទូករបស់ចៅហ្វាយស្រុកយួននោះ ហើយទៅដោយទូកនោះបត់ចូលទៅតាមព្រែកដីកតូច ១ ចំពោះទៅភូមិតាផ្លូវ ដែលជាទីមានប្រជុំពួកបណ្ដារាស្ត្រខ្មែរ គេបានរៀបបម្រុងចាំទទួលនៅផ្ទះឧបាសកម្នាក់ក្នុងភូមិនោះ កាលទៅដល់មិនឃើញមានលោកសង្ឃទេ ឃើញតែបណ្ដារាស្ត្រខ្មែរជាគ្រហស្ថចំនួនប្រហែល៤០នាក់ទាំងស្រីទាំងប្រុសមកនៅជួបជុំក្នុងទីនោះទើបចាងហ្វាងព្រះរាជបណ្ណាល័យបានឲ្យខ្ញុំនិយាយពន្យល់ពីផ្លូវព្រះពុទ្ធសាសនា និងអំពីកិច្ចដែលរាជការស្រុកកូសាំងស៊ីនមានប្រាថ្នា និងបង្កើតឲ្យមានសាលារៀនសូត្រខាងខ្មែរក្នុងស្រុក បណ្ដារាស្ត្រទាំងនោះក៏មានសេចក្ដីត្រេកអរគ្រប់គ្នា រួចចាង-ហ្វាងព្រះរាជបណ្ណាល័យត្រឡប់មកទទួលអាហារនៅទីផ្ទះយួន ១ ដែលចៅហ្វាយស្រុកនោះ បានចាត់ចែងបម្រុងក្នុងពេលនោះ ចំណែកខ្លួនខ្ញុំឧបាសកជាម្ចាស់ផ្ទះនោះបានរៀបចំឲ្យឆាន់ក្នុងទីនោះ ។

ដល់ម៉ោង ១២ កន្លះ ចេញពីនោះមកវិញហើយទៅតាមព្រែកធំ ដល់ម៉ោង ៣ រសៀលបានដល់ទៅកោះទទារ យួនហៅ (យ៉ុងតែ) ហើយឡើងពីទូកទៅនៅជួបជុំនៅផ្ទះយួន ១ ក្បែរមាត់ព្រែកនោះ លោកសង្ឃ

ដែលនិមន្តមកក្នុងទីប្រជុំនោះ ២ វត្ត គឺវត្តកោះទទាវ ១ វត្តតាកែន ១ ព្រមទាំងឧបាសកស្រីប្រុស ជាច្រើនរូប បានហ្វាងព្រះរាជបណ្ណាល័យបានសួរប្រួចប្រគេនសៀវភៅ និងរូបផ្តិតពុម្ពផ្ទួចវត្តឯទៀត ៗ ខ្ញុំបាននិយាយពីព្រះពុទ្ធសាសនាឲ្យស្តាប់ លោកសង្ឃឧបាសក ស្រី ប្រុស ក៏ស្តាប់បានមានសេចក្តីត្រេកអរគ្រប់គ្នា ៗ

ដល់ម៉ោង ៥ រសៀលចេញពីកោះទទាវទៅទៀត ដល់ម៉ោង ៦ ល្ងាចបានដល់ទៅយ៉ាងថាញ់ ហើយចូលទៅបតទូកនៅត្រើយម្ខាងខាងស្រុកតាន់ហាន់ប៉ែកខាងស្រុកខ្មែរ ទើបឡើងពីទូកទៅជិះរថយន្តដែលមកនៅចាំទទួលនៅទីតាន់ហាន់នោះ ហើយចេញពីតាន់ហាន់នោះដោយរថយន្ត ចំពោះទៅហាទៀង តាមផ្លូវកំពង់ត្រាច ដល់ម៉ោង ៧ យប់បានដល់ទៅហាទៀងវិញ ៗ

## ដំណើរចេញពីខេត្តហាទៀង ថ្ងៃ ១៤ ខែហ្វេវ្រីយេ ឆ្នាំ១៩២៨

វេលាម៉ោង ១២ ថ្ងៃត្រង់ ចេញពីហាទៀងចំពោះទៅខេត្តកែនិញ (ខ្មែរហៅខេត្តពេងជរ) តាមផ្លូវកំពង់ត្រាច កំពត ភ្នំពេញ ស្វាយរៀង តែទៅមិនដល់ក្នុងថ្ងៃនោះ វេលាម៉ោង ៤ កន្លះរសៀលដល់ភ្នំពេញ ក៏ឈប់សម្រាកនៅភ្នំពេញ ១ យប់ ៗ

ថ្ងៃ ១៥ ខែហ្វេវ្រីយេ ឆ្នាំ ១៩២៨

វេលាម៉ោង ៩ ព្រឹក ចេញពីភ្នំពេញតាមផ្លូវកូឡូនីញ៉ាល់លេខ ១

ទៅស្វាយរៀង ដល់ម៉ោង ១១ ព្រឹកបានដល់ទៅខេត្តតៃនិញទៅឈប់សំណាក់នៅផ្ទះបគ្គលោ ហើយឈប់ សម្រាកក្នុងថ្ងៃនោះ ។

## ដំណើរក្នុងខេត្តតៃនិញ ថ្ងៃ ១៦ ខែហ្វេវ្រិយេរ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ ព្រឹក ចេញពីតៃនិញចំពោះទៅវត្តត្បែងយុរ នៅក្នុងខណ្ឌត្បែងយុរ វេលាទៅដល់វត្តនោះ ក៏មិនឃើញមានលោកសង្ឃនិងឧបាសកមកជួបជុំនៅទីនោះឡើយ ទើបបានហ្វាងព្រះរាជបណ្ណាល័យឲ្យអញ្ជើញលោកចៅហ្វាយខណ្ឌមក ចៅហ្វាយខណ្ឌថាមិនដឹងជាអញ្ជើញមកដល់ក្នុងថ្ងៃនេះ ព្រោះលោកឡាដមីនីស្ត្រាទ័របង្គាប់ថា ឲ្យប្រជុំលោកសង្ឃក្នុងថ្ងៃ ១៨ ទើបលោកបានហ្វាយនោះក៏ឲ្យប្រជុំដោយរួសរាន់បានតែអស់ពួកមន្ត្រីឃុំនិងព្រះសង្ឃក្នុងវត្តត្បែងយុរនោះមកជុំជាមួយគ្នា បានហ្វាងព្រះរាជបណ្ណាល័យក៏បានសួរលោកអធិការនោះដូចវត្តឯទៀត រួចនិយាយពន្យល់ពីការគិតបង្កើតសាលារៀនខ្មែរក្នុងទីខណ្ឌនេះ ចៅហ្វាយខណ្ឌក៏ស្តាប់ចូលចិត្ត ហើយក្រេកអរចង់ឲ្យមានគ្រូបង្រៀន បានទទួលការខាងឯតាក់តែងធ្វើសាលានិងតុកៅអីដោយខ្លួនឯង សុំឲ្យតែរាជការ បាត់គ្រូមកបង្រៀន (ក្នុងខណ្ឌនេះមានច្រើនតែជាតិខ្មែរ ហេតុនោះចៅហ្វាយខណ្ឌក្តី មន្ត្រីក្នុងឃុំក្តី ក៏សុទ្ធតែជាតិខ្មែរទាំងអស់) លុះរួចកិច្ចហើយបានហ្វាងព្រះរាជបណ្ណាល័យបានប្រគេនសៀវភៅ និងរូបផ្តិតព្ទ

ដល់លោកអធិការវត្តត្បែងយុរ ហើយបានផ្ញើសៀវភៅឲ្យទុកប្រគេនដល់លោក ២ វត្តទៀតដែលទៅក្នុងខណ្ឌនេះ គឺវត្តត្រពាំងប្រីយ៍១ វត្តត្នោត ១ ដែលមិនបានមកកាន់ទីប្រជុំនេះ ហើយក៏ត្រឡប់មកឯតែនិញវិញនៅវេលាម៉ោង ១១ ព្រឹក ។

ដល់វេលាម៉ោង ៣ រសៀលចេញទៅម្តងទៀត ចំពោះទៅខណ្ឌដើងបាដែង ចៅហ្វាយខណ្ឌនេះជាតិជាខ្មែរដែរ បានរៀបចំចាំទទួលនៅទីសាលា ១ ជិតផ្ទះលោកនោះឯង ហើយបានប្រជុំលោកអធិការ ៤ វត្តដែលមានក្នុងខណ្ឌនេះ ឲ្យមកជួបជុំនៅលើសាលានោះ ព្រោះវត្តទាំង ៤ នោះសុទ្ធតែនៅឆ្ងាយ ៗ ពីផ្លូវថ្នល់វត្តទាំង ៤ នោះគឺវត្ត ដីណាយ ១ វត្តខុំ ១ វត្តក្អូក ១ វត្តត្រពាំងផ្ទូស ១ ព្រមទាំងឧបាសកស្រីប្រុសជាច្រើនក្នុងស្រុកនោះ លោកចៅហ្វាយខណ្ឌបានឲ្យមកប្រជុំគ្នាទាំងអស់នៅសា-លានោះ ។ កាលដែលយើងទៅដល់ហើយចូលទៅក្នុងទីប្រជុំនោះឧបាសក ស្រីប្រុស ក្មេងចាស់ ក៏ឈរខ្លះ អង្គុយខ្លះ ព័ទ្ធជុំវិញ ហើយចាង-ហ្វាងព្រះរាជបណ្ណាល័យបានសួររួចប្រគេនសៀវភៅ និងរូបផ្តិតពុម្ពដល់លោកអធិការទាំង ៤ វត្តនោះដូចវត្តឯទៀត ហើយបានឲ្យខ្ញុំនិយាយពន្យល់ក្នុងទីប្រជុំនោះ អំពីទោសនៃសេចក្តីល្ងង់និងអានិសង្សនៃការរៀនសូត្រចេះដឹង លុះខ្ញុំពន្យល់រួចហើយបណ្តាមនុស្សក្នុងទីប្រជុំនោះ មានលោកចៅហ្វាយខណ្ឌជាដើមក៏ស្តាប់បានចូលចិត្ត ហើយនិមន្តខ្ញុំឲ្យនិយាយ

អំពីរឿងបុណ្យផ្កាបតទៅទៀត ខ្ញុំក៏បាននិយាយឲ្យស្តាប់អស់ចំនួន ៣០ មីនុតលុះចប់ហើយ ចាងហ្វាងព្រះរាជបណ្ណាល័យ ក៏បាននិយាយពន្យល់ថែមទៀត អំពីការដាស់តឿនឲ្យខំប្រឹងរៀនសូត្រ លុះដល់វេលាម៉ោង ៩ ល្ងាចក៏ត្រឡប់មកឯតៃនិញវិញ ។

ថ្ងៃ ១៣ ខែហ្វេវ្រីយេ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ ព្រឹក ចេញចំពោះទៅកាន់ទីប្រជុំវត្តមន្ត្រីសាគរក្នុងខណ្ឌាត្វេង វត្តមន្ត្រីសាគរនោះជាវត្តកសាងថ្មី ទីវិហារក៏ពុំទាន់កើតនូវឡើយ ទើបនឹងបានធ្វើជាពេងបណ្តោះអាសន្ន ទាំងកុដិសាលាក៏ពុំទាន់កើតនូវឡើយ ទើបនឹងបានធ្វើជាបណ្តោះអាសន្នទាំងអស់ សព្វថ្ងៃនេះកំពុងតែកសាង តែវត្តនេះនៅប្របផ្លូវថ្នល់ តទៅមុខទៅ ទំនងកើតទៅជាវត្តល្អស្រួលបួល ហេតុនោះលោកចៅហ្វាយខណ្ឌាត្វេង ឈ្មោះឡាំ - ហង់ ជាតិជាខ្មែរ បានមករៀបចំចាត់ចែងចាំទទួលចាងហ្វាងព្រះរាជបណ្ណាល័យនៅទីវត្តនេះ បានប្រជុំលោកសង្ឃពីវត្តខាងក្រៅឲ្យមកជួបជុំនៅទីវត្តនេះ ៥ វត្តទៀត គឺវត្តជេតវ័ន ១ វត្តអម្ពវ័ន ១ វត្តព្រះមៀត ១ វត្តរាជហង្ស ១ វត្តឈើទាលជ្រុំ ១ រួមទាំងវត្តមន្ត្រីសាគរ ១ ទៀតជា ៦ វត្ត បណ្តាវត្តទាំងអស់នេះ មានវត្តជេតវ័នជាវត្តមាំមួនជាងគេ តែទាស់ទីនៅឆ្ងាយពីផ្លូវថ្នល់ ឯលោកអធិការវត្តជេតវ័នឈ្មោះចាប គឺលោកចៅហ្វាយខណ្ឌឡាំ - ហង់ បានផ្តុកផ្តាក់ឲ្យជាអ្នកចាត់ចែងការរៀបចំទទួលនេះ ។

កាលដែលយើងទៅដល់ទីប្រជុំវត្តនេះ បានឃើញរបៀបដែលរៀប

ទទួលនោះជាអធិកអធម គឺមានធ្វើស៊ីមជាខ្លោងទ្វារ ១ នៅប្រឡាយផ្លូវថ្នល់បែក ចូលទៅវត្ត ដល់ទីជិតវត្តមានស៊ីមជាខ្លោងទ្វារ ១ ទៀត ហើយអុជផាវ ទទួលពុសន្ធឹកទ្រហឹងអឹងអាប់ លុះចូលទៅដល់ក្នុងទីវត្ត ឃើញលោកសង្ឃឈរជាជួរ ចំនួន ៤០ អង្គ មានក្មេងប្រុសកាន់ផ្កាចំនួន ២០ នាក់ និងក្មេងស្រីតូច ៗ កាន់ផ្កាចំនួន ២០ នាក់ ឈរជាជួរសងខាង និងមនុស្សស្រីប្រុសជាច្រើនប្រមាណជាង ៣០០ នាក់ ៗ យើងបានចូលទៅក្នុងទីពេនដែលជំនួសវិហារជាទីគេរៀបចំបម្រុងទទួល លុះជួបជុំព្រមគ្នាក្នុងទីនោះហើយ ទើបពួកក្មេង ៗ ប្រុសស្រីដែលកាន់ផ្កា ចូលយកផ្កានោះទៅជូនចាងហ្វាងព្រះរាជបណ្ណាល័យ ៗ បានទទួលហើយឲ្យយកទៅបូជាដល់ព្រះពុទ្ធរូបក្នុងវិហារនោះ ។

ក្នុងពេលនោះលោកអធិការវត្តជេតវ័ន បានសូត្រសេចក្ដីជាខ្មែរនៅមុខចាងហ្វាងព្រះរាជបណ្ណាល័យថា ម៉ាដឹមូហ្វៃហ្ស៊ែលអាត្មាភាពបានទទួលដីកាលោកហៅយ៉ាយខណ្ឌឆ្នេង ពីថ្ងៃមុន សេចក្ដីថា នៅថ្ងៃ ១៧ ខែហ្វេវ្រីយេរ ឆ្នាំ ១៩២៨នេះ ម៉ាដឹមូហ្វៃហ្ស៊ែលស៊ុយសានការប៉ុឡែសចាងហ្វាងព្រះរាជបណ្ណាល័យនៅភ្នំពេញនឹងមកដល់ក្នុងខណ្ឌនេះ ដើម្បីនឹងបានពន្យល់ពីកិច្ចដែលមានប្រយោជន៍ក្នុងព្រះពុទ្ធសាសនា នោះអាត្មាភាពនិងឧបាសកឧបាសិកាទាំងឡាយ មានសេចក្ដីត្រេកអរក្រៃពេក ដោយហេតុដែលអស់យើងនៅក្នុងស្រុកនេះ ជាបច្ចន្តប្រទេសចុងស្រុកច្រើនតែ

មានសេចក្តីល្ងង់ទៀត ក៏ឥឡូវនេះ ម៉ាដឹមូហ៊្សែល បានអញ្ជើញមកដល់ហើយ បានទិយាយបំភ្លឺពីកិច្ចរៀនសូត្រចំណេះវិជ្ជាឲ្យបានភ្លឺស្វាងដល់គ្នា នោះអាត្មាភាពមានអំណរក្រៃពេកនឹងគុណម៉ាដឹមូហ៊្សែល ។

អាត្មាភាពសូមចម្រើនពរឲ្យម៉ាដឹមូហ៊្សែលតាំងនៅក្នុងសេចក្តីសុខ សេចក្តីចម្រើនតទៅ ។

ម៉្យាងទៀតសូម ម៉ាដឹមូហ៊្សែល នាំយកពត៌មាន នៃអាត្មាភាពគ្រប់អង្គ និងលោកចៅហ្វាយខណ្ឌ ហើយនិងបណ្តាស្រុកក្នុងខណ្ឌធ្វេងខែត្រពេងដីរនេះ ទៅសូមក្រាបបង្គំទូលព្រះករុណាជាម្ចាស់ជីវិតថាយើងទាំង-អស់គ្នានេះ សូមជ្រកកោនក្រោមបុណ្យបារមីនៃព្រះករុណាជាម្ចាស់ជីវិត សូមបានសេចក្តីសុខតរៀងទៅ ។

លំដាប់អំពីនោះលោកចៅហ្វាយខណ្ឌ ឡាំ ហង់ បានសូត្រសេចក្តីខ្មែរម៉្យាងទៀតថា ម៉ាដឹមូហ៊្សែល កាលនៅថ្ងៃ ៦ ខែហ្វេវរីយេរ ឆ្នាំ ១៩២៨ នេះ លោកឡាដមីនីស្ត្រាទ័រនៅប៉ុស្តិ៍ពេងដីរ បានបង្គាប់មកខ្ញុំបាទជាចៅហ្វាយស្រុក ថានៅថ្ងៃ ១៧ ខែហ្វេវរីយេរនេះ ម៉ាដឹមូហ៊្សែល ស៊ុយសានការប៊ីឡែស ជាចាងហ្វាងព្រះរាជបណ្ណាល័យនៅភ្នំពេញ និងអញ្ជើញមកដល់ក្នុងខណ្ឌនេះ ដើម្បីនឹងបានពន្យល់ពីកិច្ចរៀនសូត្រចំណេះវិជ្ជាខាងខ្មែរនឹងផ្លូវព្រះពុទ្ធសាសនា ដល់ព្រះសង្ឃនិងឧបាសក ឧបាសិកា នោះខ្ញុំបាទក៏បានចេញសំបុត្រ និមន្តព្រះសង្ឃគ្រប់វត្តក្នុងស្រុកនេះ ឲ្យ

មកជួបជុំនៅទីវត្តមន្ត្រីសាគរក្នុងឃុំត្រពាំងរបង់នេះ ១ អន្ទើដោយមន្ត្រីឃុំ និងឧបាសក ឧបាសិកាគ្រប់ឃុំស្រុកនេះ ដូចមានប្រជុំក្នុងកាលឥឡូវនេះៗ

ខ្ញុំបាទសូមថ្វែងជំនួសមន្ត្រីឃុំនិងពួកឧបាសក ឧបាសិកា ជាសេចក្តីសព្វសាធុការ ជូនលោកស្រី ស៊ុយ សាន កាប៉ីឡែសសូមឲ្យលោកស្រីបានប្រកបដោយទូវពរទាំង ៤ ប្រការគឺ អាយុ វណ្ណ សុខ ពល តរៀងទៅ ហើយយើងខ្ញុំសូមពរអំពីលោកស្រីវិញ សូមឲ្យយើងខ្ញុំបានប្រកបដោយសេចក្តីសុខចម្រើនតទៅ ។

ម៉្យាងទៀត សូមលោកស្រីនាំរឿងយើងខ្ញុំទាំងឡាយនេះទៅក្រាបថ្វាយបង្គំក្រោមល្អងធូលីព្រះបាទ ព្រះករុណាជាម្ចាស់ជីវិតលើត្បូង ថាយើងខ្ញុំសូមជ្រកកោនក្រោមបុណ្យព្រះបារមី នៃព្រះករុណាជាម្ចាស់ជីវិតសូមឲ្យបានសេចក្តីសុខដ៏អង្វែងតទៅ ។

លុះចប់សេចក្តីសូត្រ របស់លោកចៅហ្វាយស្រុកហើយទើបមេឃុំម្នាក់ជាតិខ្មែរ សូត្រសេចក្តី ១ យ៉ាងទៀត ជាពាក្យយួន ជំនួសមន្ត្រីឃុំនិងបណ្តាពស្រ្តទាំងអស់ សេចក្តីដែលសូត្រនោះប្រែមកជាភាសាខ្មែរថាម៉ាដឹមូហ៊ែ្យល យើងខ្ញុំជាកុង្ស៊ីយ៉េរឈ្មោះ ហៀង យ៉ាំង ពាយ និងមេឃុំៗត្រពាំងរបង សូមក្រាបប្រតិបត្តិម៉ាដឹមូហ៊ែ្យល ៗ ក្នុងឱកាសដែលម៉ាដឹមូ-ហ៊ែ្យលបានអញ្ជើញមកដល់ក្នុងខណ្ឌធ្វេង ឃុំត្រពាំងរបង់នេះ ដើម្បីនឹងបានបំភ្លឺពន្យល់អស់ទាំងបណ្តាពស្រ្តដែលនៅក្នុងឃុំខ្មែរនេះ ឲ្យបានភ្លឺអំពី

ការបង្ហាត់បង្រៀនចំណេះវិជ្ជាផ្សេង ៗ មានអក្ខរវិជ្ជាជាដើម ដើម្បីនឹងឲ្យបានចេះដឹងចម្រើនឡើង ដោយឥតមានសេចក្ដីធុញទ្រាន់ និងសេចក្ដីនឿយហត់ក្នុងដំណើរដែលអញ្ជើញមកនេះ ។ យើងខ្ញុំក៏បានទទួលបង្គាប់ពីលោកឡាដមីនីស្ត្រាទ័រនៅតែនិញ ហើយបានមកសន្និបាតប្រជុំក្នុងទីនេះ មិនដឹងត្រិះរិះយ៉ាងណាឲ្យគួរសមដល់ការទទួលនិងសេចក្ដីអរគុណម៉ាដឹម្វូហ្សែលឡើយ ។ ខ្ញុំជាកុងស៊ីយេនិងមេឃុំ ៗ ត្រពាំងរបងនេះ ជំនួសមន្ត្រីឃុំ និងបណ្ដារាស្ត្រ មកទទួលដោយសេចក្ដីត្រេកអរក្រៃពេក ។ សូមម៉ាដឹម្វូហ្សែលមានជន្មាយុបាន ១០០ វស្សា និង សូមឲ្យបានសេចក្ដីសុខ ចម្រើនអស់កាលជាអង្វែងទៅ ៖

លុះចប់សេចក្ដីសូត្ររបស់មេឃុំហើយ ទើបចាងហ្វាងព្រះរាជបណ្ណាល័យបាននិយាយតតបនឹងសេចក្ដីសូត្រទាំង ៣ នោះថា ។

ព្រះករុណាគ្រប់អង្គលោកចៅហ្វាយស្រុក និងអ្នកមេឃុំ ខ្ញុំដែលបានមកដល់ស្ថានទីនេះ ហើយបានឃើញអស់លោកអ្នកបានមកជួបជុំក្នុងទីនេះ ព្រមទាំងបានប្រមូលបណ្ដារាស្ត្រស្រីប្រុស ទាំងអស់ឲ្យបានមកជួបជុំគ្នា បានធ្វើការបដិសណ្ឋារដោយមាំមួននេះ ខ្ញុំក៏មានអំណរដោយក្រៃលែង ។ ខ្ញុំដែលបានឃើញព្រះសង្ឃនិមន្តមកដោយមានកិច្ចជា សាមគ្គីព្រមព្រៀងដូចនេះ ខ្ញុំមានសង្ឃឹមថាព្រះសង្ឃទាំងអស់ នឹងបានយកព្រះទ័យទុកដាក់ក្នុងការរៀនសូត្រ ហើយប្រតិបត្តិតាមធម៌វិន័យ ព្រះពុទ្ធ

សាសនាមិនខាន ។ ខ្ញុំមានសង្ឃឹមម៉្យាងទៀតថា ព្រះសង្ឃគ្រប់អង្គ នឹងលោកចៅហ្វាយស្រុក និងអ្នកមេឃុំព្រមទាំងមន្ត្រីក្នុងឃុំនេះ នឹងបាន យកចិត្តទុកដាក់ ជួយចាត់ចែងបង្កើតឲ្យមានទីកន្លែងរៀនសូត្រ និងឲ្យ មានគ្រូជាអ្នកបង្ហាត់បង្រៀន ហើយនិងបានជួយរំឭកដាស់តឿនអស់អា-ណាប្រជានុរាស្ត្រព្រមទាំងកូនចៅ របស់អាណាប្រជានុរាស្ត្រជាតិខ្មែរ ឲ្យខំយកចិត្តទុកដាក់ក្នុងការរៀនសូត្រចំណេះវិជ្ជាផ្សេងៗមាន អក្ខរវិជ្ជាជា-ដើមនិងវិជ្ជាខាងផ្លូវព្រះពុទ្ធសាសនាឲ្យបានចេះដឹងឡើង ដើម្បីនឹងបាន បំណេះវិជ្ជាទាំងនោះទុកជាសេនាធាហាន និងបានបំផ្លាញ ឬ កំចាត់បង់ នូវពួកបច្ចាមិត្រពោលគឺសេចក្តីល្ងង់ ដែលរាំចូលមកកជាបន្ទាយនៅក្នុង សន្តានរបស់ជាតិខ្មែរ ។ កាលបើធ្វើបានដូចនេះហើយព្រះពុទ្ធសាសនា ក្នុងស្រុកនេះ ព្រមទាំងសេចក្តីចេះដឹងសេចក្តីរុងរឿងនិងសេចក្តីសុខ ក៏ និងបានកើតមានចម្រើនឡើងដោយលំដាប់ ៗតទៅ ។

រួចហើយ ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរលោកអធិការគ្រប់វត្ត ដូចរបៀបសួរក្នុងវត្តឯទៀត ៗ ហើយបានប្រគេនសៀវភៅ និងរូបផ្តិតពុម្ព ដល់លោកអធិការគ្រប់វត្ត រួចបាននិយាយពន្យល់អំពីការរៀនសូត្រ និង អំពីការគិតបង្កើតសាលាបង្រៀនខ្មែរក្នុងខណ្ឌនេះ លោកចៅហ្វាយស្រុក ព្រមទាំងមេឃុំ និងមន្ត្រីក្នុងឃុំនោះក៏មានអំណររាល់គ្នា ព្រមព្រៀងគ្នាថា គួរបង្កើតឲ្យមានសាលារៀនក្នុងវត្តមន្ត្រីសាគរនេះ ព្រោះវត្តនេះជាវត្តថ្មី មែនតែនៅជិតថ្នល់ ហើយជាទីប្រជុំបណ្តារាស្ត្រខ្មែរផង ។ កាលបើរួច

កិច្ចក្នុងទីប្រជុំនេះហើយ ចាងហ្វាងព្រះរាជបណ្ណាល័យបានឲ្យពរសព្ទសាធុការដល់ព្រះភិក្ខុសង្ឃ និងមន្ត្រី និងបណ្ឌាក្រស្ត្រទាំងអស់ រួចលាត្រឡប់មកឯបគ្គាលោ នៅតែនិញវិញ ។

កិច្ចនៃដំណើរទៅក្នុងដែនកូសាំងស៊ីន ចំពោះខែត្រដែលមានវត្តលោកសង្ឃខ្មែរ ក៏ហើយស្រេចតែប៉ុណ្ណោះ ។

## ដំណើរចេញពីខែត្រ តៃនិញ

វេលាម៉ោង ១២ កន្លះជ្រេពីត្រង់ រៀបដំណើរចេញពី តៃនិញ ចំពោះទៅព្រៃនគរ តែមុននឹងចេញទៅ ចាងហ្វាងព្រះរាជបណ្ណាល័យបានថតរូបយើងទាំងអស់គ្នា ដែលមានដំណើរមកជាមួយ នៅជិតទីបគ្គាលោ លុះថតរួចហើយក៏ចេញពីទីនោះទៅដល់ម៉ោង ៣ រសៀលបានដល់ទៅព្រៃនគរ ហើយឈប់សម្រាកនៅព្រៃនគរក្នុងថ្ងៃនោះ ។

## ដំណើរត្រឡប់ពីព្រៃនគរមកភ្នំពេញ ថ្ងៃ ១៨ ខែហ្វេវរីយេរ ឆ្នាំ ១៩២៨

វេលាម៉ោង ៩ ព្រឹក ខ្លួនខ្ញុំនិងឈ្មោះ ដី បានចេញពីព្រៃនគរដោយរថយន្ត ប៉ុស្តាល់ ចំពោះមកក្រុងភ្នំពេញ ដល់ម៉ោង ១២ កន្លះជ្រេពីត្រង់ បានដល់មកទីក្រុងភ្នំពេញដោយសេចក្តីសុខស្រួល ។ ឯចាងហ្វាងព្រះរាជបណ្ណាល័យ ក៏ចេញពីព្រៃនគរមកកាន់ក្រុងភ្នំពេញ ដោយរថយន្តផ្សេង បានដល់មកភ្នំពេញក្នុងវេលាក្រោយបន្ទាប់ ១ គ្នា ។

